អជ្ឈត្តិកោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(២៨៧) ហេតុយា តីណិ ។

## នឧបាទាទុកនកុសលត្តិកេ

## ឧបាទាទុកកុសលត្តិកំ(១)

(២៨៨) ន នោឧបាទា ន កុសលំ ធម្មំ បច្ចយា នោឧបាទា កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ឯកំ ។

## នឧបាទិន្នទុកនកុសលត្តិកេ

## ឧបាទិន្នទុកកុសលត្តិកំ(២)

(២៨៩) ន អនុបាទិន្នំ ន កុសលំ ធម្មំ បច្ចយា អនុបាទិន្នោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ឯកំ ។

## ឧបាទានគោច្ឆកទុកនកុសលត្តិកេ

## ឧបាទានគោច្ឆកទុកកុសលត្តិកំ(៣)

(២៩០) ន ឧបាទានំ ន អកុសលំ ធម្មំ បច្ចយា

១ ម. នឧបាទាទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។ ២ ម. នឧបាទិន្នទុក ... សលត្តិកន្តិ ន ទិស្សតិ ។ ៣ ម. នឧបាទានគោច្ឆកទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។





មិនមែនប្រព្រឹត្តទៅខាងក្នុង មិនមែនជាកុសល កើតឡើង ព្រោះហេតុប្បច្ច័យ ។

(២៨៧) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នឧបាទាទុកនកុសលត្តិកៈ

## ឧបាទាទុកកុសលត្តិកៈ

(២៨៨) ធម៌ មិនមែនជាឧបាទា ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជាមិនមែនជាឧបាទា មិនមែនជាកុសល កើតឡើង ព្រោះហេតុប្បច្ច័យ ។ មានវារៈ ១ ។

## នឧបាទិន្នទុកនកុសលត្តិកៈ

## ឧបាទិន្នទុកកុសលត្តិកៈ

(២៨៩) ធម៌ មិនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជាមិនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក មិនមែនជាកុសល កើតឡើង ព្រោះហេតុប្បច្ច័យ ។ មានវារៈ ១ ។

## ឧបាទានគោច្ឆកទុកនកុសលត្តិកៈ

## ឧបាទានគោច្ឆកទុកកុសលត្តិកៈ

(២៩០) ធម៌ ជាឧបាទាន ជាអកុសល ពឹងផ្អែក នឹងធម៌

នុបាទានោ អកុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(២៩១) ហេតុយា តីណិ ។

## កិលេសគោច្ឆកទុកនកុសលត្តិកេ
## កិលេសគោច្ឆកទុកកុសលត្តិកំ(១)

(២៩២) នោកិលេសំ នអកុសលំ ធម្មំ បច្ចយា កិលេសោ អកុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(២៩៣) ហេតុយា តីណិ ។

## នទស្សនេនបហាតព្វទុកនកុសលត្តិកេ
## ទស្សនេនបហាតព្វទុកកុសលត្តិកំ(២)

(២៩៤) នទស្សនេនបហាតព្វំ នកុសលំ ធម្មំ បច្ចយា នទស្សនេនបហាតព្វោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(២៩៥) ហេតុយា ឯកំ ។

(២៩៦) នទស្សនេនបហាតព្វំ នអកុសលំ ធម្មំ បច្ចយា ទស្សនេនបហាតព្វោ អកុសលោ ធម្មោ

១ ម. កិលេសគោច្ឆកទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។ ២ ម. នទស្សនេនបហាតព្វទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។



មិនមែនជាឧបាទាន មិនមែនជាអកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(២៩១) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## កិលេសគោច្ឆកទុកនកុសលត្តិកៈ
## កិលេសគោច្ឆកទុកកុសលត្តិកៈ

(២៩២) ធម៌ ជាកិលេស ជាអកុសល ពឹងផ្អែក នឹងធម៌ មិនមែនជាកិលេស មិនមែនជាអកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(២៩៣) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នទស្សនេនបហាតព្វទុកនកុសលត្តិកៈ
## ទស្សនេនបហាតព្វទុកកុសលត្តិកៈ

(២៩៤) ធម៌ ដែលមិនត្រូវលះដោយទស្សនៈ ជាកុសល ពឹងផ្អែក នឹងធម៌ ដែលមិនត្រូវលះដោយទស្សនៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(២៩៥) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

(២៩៦) ធម៌ ដែលត្រូវលះដោយទស្សនៈ ជាអកុសល ពឹងផ្អែក នឹងធម៌ ដែលមិនត្រូវលះដោយទស្សនៈ មិនមែនជាអកុសល

ឧប្បជ្ជតិ ហេតុប្បច្ចយា ន ទស្សនេន បហាតព្វំ ន អកុសលំ ធម្មំ បច្ចយា ន ទស្សនេន បហាតព្វោ អកុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(២៩៧) ហេតុយា ទ្វេ ។

(២៩៨) ន ទស្សនេន បហាតព្វំ ន អព្យាកតំ ធម្មំ បដិច្ច ន ទស្សនេន បហាតព្វោ អព្យាកតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ន ន ទស្សនេន បហាតព្វំ ន អព្យាកតំ ធម្មំ បដិច្ច ន ទស្សនេន បហាតព្វោ អព្យាកតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(២៩៩) ហេតុយា ទ្វេ ។

## នភាវនាយបហាតព្វទុកនកុសលត្តិកេ
## ភាវនាយបហាតព្វទុកកុសលត្តិកំ(១)

(៣០០) ន ភាវនាយ បហាតព្វំ ន កុសលំ ធម្មំ បច្ចយា ន ភាវនាយ បហាតព្វោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣០១) ហេតុយា ឯកំ ។

១ ម. នភាវនាយបហាតព្វទុក . . . កុសលត្តិកន្តិ ន ទិស្សតិ ។



ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ធម៌ ដែលមិនត្រូវលះដោយទស្សនៈ ជាអកុសល ពឹងផ្អែក នឹងធម៌ ដែលមិនត្រូវលះដោយទស្សនៈ មិនមែនជាអកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(២៩៧) ក្នុងហេតុប្បច្ច័យ មានវារៈ ២ ។

(២៩៨) ធម៌ ដែលមិនត្រូវលះដោយទស្សនៈ ជាអព្យាក្រឹត អាស្រ័យ នូវធម៌ ដែលមិនត្រូវលះដោយទស្សនៈ មិនមែនជាអព្យាក្រឹត ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ធម៌ ដែលមិនត្រូវលះដោយទស្សនៈ ជាអព្យាក្រឹត អាស្រ័យ នូវធម៌ មិនមែនជាមិនត្រូវលះដោយទស្សនៈ មិនមែនជាអព្យាក្រឹត ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(២៩៩) ក្នុងហេតុប្បច្ច័យ មានវារៈ ២ ។

## នភាវនាយបហាតព្វទុកនកុសលត្តិកៈ
## ភាវនាយបហាតព្វទុកកុសលត្តិកៈ

(៣០០) ធម៌ ដែលមិនត្រូវលះដោយភាវនា ជាកុសល ពឹងផ្អែក នឹងធម៌ ដែលមិនត្រូវលះដោយភាវនា មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣០១) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នទស្សនេនបហាតព្វហេតុកទុកនកុសលត្តិកេ
## ទស្សនេនបហាតព្វហេតុកទុកកុសលត្តិកំ[១]

(៣០២) ន ទស្សនេន បហាតព្វហេតុកំ ន កុសលំ ធម្មំ បច្ចយា ន ទស្សនេន បហាតព្វហេតុកោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣០៣) ហេតុយា ឯកំ ។

## នភាវនាយបហាតព្វហេតុកទុកនកុសលត្តិកេ
## ភាវនាយបហាតព្វហេតុកទុកកុសលត្តិកំ[២]

(៣០៤) ន ភាវនាយ បហាតព្វហេតុកំ ន កុសលំ ធម្មំ បច្ចយា ន ភាវនាយ បហាតព្វហេតុកោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣០៥) ហេតុយា ឯកំ ។

## នសវិតក្កទុកនកុសលត្តិកេ
## សវិតក្កទុកកុសលត្តិកំ[៣]

(៣០៦) ន សវិតក្កំ ន កុសលំ ធម្មំ បច្ចយា សវិតក្កោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

---

១ ម. នទស្សនេនបហាតព្វហេតុកទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។ ២ ម. នភាវនាយបហាតព្វហេតុកទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។ ៣ ម. នសវិតក្កទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។



## ទស្សនេនបហាតព្វហេតុកទុកនកុសលត្តិកៈ
## ទស្សនេនបហាតព្វហេតុកទុកកុសលត្តិកៈ

(៣០២) ធម៌ មានហេតុដែលមិនត្រូវលះដោយទស្សនៈ ជាកុសល ពឹងផ្អែក នឹងធម៌ មានហេតុដែលមិនត្រូវលះដោយទស្សនៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣០៣) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នភាវនាយបហាតព្វហេតុកទុកនកុសលត្តិកៈ
## ភាវនាយបហាតព្វហេតុកទុកកុសលត្តិកៈ

(៣០៤) ធម៌ មានហេតុដែលមិនត្រូវលះដោយភាវនា ជាកុសល ពឹងផ្អែក នឹងធម៌ មានហេតុដែលមិនត្រូវលះដោយភាវនា មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣០៥) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នសវិតក្កទុកនកុសលត្តិកៈ
## សវិតក្កទុកកុសលត្តិកៈ

(៣០៦) ធម៌ ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រព្រឹត្តទៅជាមួយនឹងវិតក្កៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣០៧) ហេតុយា តីណិ ។

នសវិតក្កទុកនកុសលត្តិកេ

សវិតក្កទុកកុសលត្តិកំ[១]

(៣០៨) នសវិតក្កំ នកុសលំ ធម្មំ បច្ចយា សវិតក្កោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣០៩) ហេតុយា តីណិ ។

នសប្បីតិកទុកនកុសលត្តិកេ

សប្បីតិកទុកកុសលត្តិកំ[២]

(៣១០) នសប្បីតិកំ នកុសលំ ធម្មំ បច្ចយា សប្បីតិកោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣១១) ហេតុយា តីណិ ។

នបីតិសហគតទុកនកុសលត្តិកេ

បីតិសហគតទុកកុសលត្តិកំ[៣]

(៣១២) នបីតិសហគតំ នកុសលំ ធម្មំ បច្ចយា បីតិសហគតោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

---

១ ម. នសវិតក្កទុក .. កុសលត្តិកន្តិ ន ទិស្សតិ ។ ២ ម. នសប្បីតិកទុក .. កុសលត្តិកន្តិ ន ទិស្សតិ ។ ៣ ឧ. នបីតិសហគតទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។



(៣០៧) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

នសវិតក្កទុកនកុសលត្តិកៈ

សវិតក្កទុកកុសលត្តិកៈ

(៣០៨) ធម៌ ប្រព្រឹត្តទៅជាមួយនឹងវិតក្កៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រព្រឹត្តទៅជាមួយនឹងវិតក្កៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣០៩) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

នសប្បីតិកទុកនកុសលត្តិកៈ

សប្បីតិកទុកកុសលត្តិកៈ

(៣១០) ធម៌ ប្រព្រឹត្តទៅជាមួយនឹងបីតិ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រព្រឹត្តទៅជាមួយនឹងបីតិ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣១១) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

នបីតិសហគតទុកនកុសលត្តិកៈ

បីតិសហគតទុកកុសលត្តិកៈ

(៣១២) ធម៌ ប្រកបដោយបីតិ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រកបដោយបីតិ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣១៣) ហេតុយា តីណិ ។

នសុខសហគតទុកនកុសលត្តិកេ

សុខសហគតទុកកុសលត្តិកំ[១]

(៣១៤) ន សុខសហគតំ ន កុសលំ ធម្មំ បច្ចយា សុខសហគតោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣១៥) ហេតុយា តីណិ ។

នឧបេក្ខាសហគតទុកនកុសលត្តិកេ

ឧបេក្ខាសហគតទុកកុសលត្តិកំ[២]

(៣១៦) ន ឧបេក្ខាសហគតំ ន កុសលំ ធម្មំ បច្ចយា ឧបេក្ខាសហគតោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣១៧) ហេតុយា តីណិ ។

នកាមាវចរទុកនកុសលត្តិកេ

កាមាវចរទុកកុសលត្តិកំ[៣]

(៣១៨) ន នកាមាវចរំ ន កុសលំ ធម្មំ បច្ចយា

---

១ ម. នសុខសហគតទុក ... កុសលត្តិកត្តិ ន ទិស្សតិ ។ ២ ម. ននបេក្ខាសហគតទុក ... កុសលត្តិកត្តិ ន ទិស្សតិ ។ ៣ ម នកាមាវចរទុក ... កុសលត្តិកត្តិ ន ទិស្សតិ ។



(៣១៣) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

នសុខសហគតទុកនកុសលត្តិកៈ

សុខសហគតទុកកុសលត្តិកៈ

(៣១៤) ធម៌ ប្រកបដោយសុខ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រកបដោយសុខ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣១៥) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

នឧបេក្ខាសហគតទុកនកុសលត្តិកៈ

ឧបេក្ខាសហគតទុកកុសលត្តិកៈ

(៣១៦) ធម៌ ប្រកបដោយឧបេក្ខា ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រកបដោយឧបេក្ខា មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣១៧) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

នកាមាវចរទុកនកុសលត្តិកៈ

កាមាវចរទុកកុសលត្តិកៈ

(៣១៨) ធម៌ មិនមែនជាកាមាវចរៈ ជាកុសល ពឹងផ្អែក នឹងធម៌

នកាមាវចរោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ន នកាមាវចរំ នកុសលំ ធម្មំ បច្ចយា កាមាវចរោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៥៩) ហេតុយា ទ្វេ ។

## នរូបាវចរទុកនកុសលត្តិកេ
## រូបាវចរទុកកុសលត្តិកំ[១]

(៣៦០) នរូបាវចរំ នកុសលំ ធម្មំ បច្ចយា រូបាវចរោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ... នរូបាវចរោ កុសលោ ធម្មោ ... ។ ទ្វេ ។

## នអរូបាវចរទុកនកុសលត្តិកេ
## អរូបាវចរទុកកុសលត្តិកំ[២]

(៣៦១) នអរូបាវចរំ នកុសលំ ធម្មំ បច្ចយា អរូបាវចរោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ... នអរូបាវចរោ កុសលោ ធម្មោ ... ។ ទ្វេ ។

---

១ ម. នរូបាវចរទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។ ២ ម. នអរូបាវចរទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។



មិនមែនជាមិនមែនជាកាមាវចរៈ មិនមែនជាកុសល កើតឡើង ព្រោះហេតុប្បច្ច័យ ធម៌ ជាកាមាវចរៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជាមិនមែនជាកាមាវចរៈ មិនមែនជាកុសល កើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៥៩) ក្នុងហេតុប្បច្ច័យ មានវារៈ ២ ។

## នរូបាវចរទុកកុសលត្តិកៈ
## រូបាវចរទុកកុសលត្តិកៈ

(៣៦០) ធម៌ ជារូបាវចរៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជារូបាវចរៈ មិនមែនជាកុសល កើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ មិនមែនជារូបាវចរៈ ជាកុសល ... ។ មានវារៈ ២ ។

## នអរូបាវចរទុកនកុសលត្តិកៈ
## អរូបាវចរទុកកុសលត្តិកៈ

(៣៦១) ធម៌ ជាអរូបាវចរៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជាអរូបាវចរៈ មិនមែនជាកុសល កើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ មិនមែនជាអរូបាវចរៈ ជាកុសល ... ។ មានវារៈ ២ ។

## នបរិយាបន្នទុកនកុសលត្តិកេ
## បរិយាបន្នទុកកុសលត្តិកំ[១]

(៣២២) នអបរិយាបន្នំ នកុសលំ ធម្មំ បច្ចយា អបរិយាបន្នោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ... បរិយាបន្នោ កុសលោ ធម្មោ ... ។ ទ្វេ ។

## ននិយ្យានិកទុកនកុសលត្តិកេ
## និយ្យានិកទុកកុសលត្តិកំ[២]

(៣២៣) ននិយ្យានិកំ នកុសលំ ធម្មំ បច្ចយា និយ្យានិកោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ... អនិយ្យានិកោ កុសលោ ធម្មោ ... ។ ទ្វេ ។

## ននិយតទុកនកុសលត្តិកេ
## និយតទុកកុសលត្តិកំ[៣]

(៣២៤) ននិយតំ នកុសលំ ធម្មំ បច្ចយា និយតោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ... អនិយតោ កុសលោ ធម្មោ ... ។ ទ្វេ ។

---

១ ម. នបរិយាបន្នទុក ... កុសលត្តិកត្តិ ន ទិស្សតិ ។ ២ ម. ននិយ្យានិកទុក ... កុសលត្តិកត្តិ ន ទិស្សតិ ។ ៣ ម. ននិយតទុក ... កុសលត្តិកត្តិ ន ទិស្សតិ ។



## នបរិយាបន្នទុកនកុសលត្តិកៈ
## បរិយាបន្នទុកកុសលត្តិកៈ

(៣២២) ធម៌ ជាអបរិយាបន្នៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជាអបរិយាបន្នៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ ជាបរិយាបន្នៈ ... ជាកុសល ... ។ មានវារៈ ២ ។

## ននិយ្យានិកទុកនកុសលត្តិកៈ
## និយ្យានិកទុកកុសលត្តិកៈ

(៣២៣) ធម៌ ជានិយ្យានិកៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជានិយ្យានិកៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ ជាអនិយ្យានិកៈ ជាកុសល ... ។ មានវារៈ ២ ។

## ននិយតទុកនកុសលត្តិកៈ
## និយតទុកកុសលត្តិកៈ

(៣២៤) ធម៌ ជានិយតៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជានិយតៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ ជាអនិយតៈ ជាកុសល ... ។ មានវារៈ ២ ។

## នសឧត្តរទុកនកុសលត្តិកេ

## សឧត្តរទុកកុសលត្តិកំ[១]

(៣២៥) នអនុត្តរំ នកុសលំ ធម្មំ បច្ចយា អនុត្តរោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ... សឧត្តរោ កុសលោ ធម្មោ ... ។ ទ្វេ ។

## នសរណទុកនកុសលត្តិកេ

## សរណទុកកុសលត្តិកំ[២]

(៣២៦) នសរណំ នកុសលំ ធម្មំ បច្ចយា អរណោ កុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣២៧) ហេតុយា ឯកំ ។

(៣២៨) នសរណំ នអកុសលំ ធម្មំ បច្ចយា សរណោ អកុសលោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣២៩) ហេតុយា ឯកំ ។

(៣៣០) នសរណំ នអព្យាកតំ ធម្មំ បដិច្ច អរណោ អព្យាកតោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

---

១ ម. នសឧត្តរទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។ ២ ម. នសរណទុក ... កុសលត្តិកន្តិ ន ទិស្សតិ ។



## នសឧត្តរទុកនកុសលត្តិកៈ

## សឧត្តរទុកកុសលត្តិកៈ

*(៣២៥) ធម៌ មិនមែនជាឧត្តរៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនជាមិនមែនជាឧត្តរៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ ប្រព្រឹត្តទៅជាមួយនឹងឧត្តរៈ ជាកុសល ... ។ មានវារៈ២ ។*

## នសរណទុកនកុសលត្តិកៈ

## សរណទុកកុសលត្តិកៈ

*(៣២៦) ធម៌ មិនមានរណៈ ជាកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រព្រឹត្តទៅជាមួយនឹងរណៈ មិនមែនជាកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។*

*(៣២៧) ក្នុងហេតុប្បច្ច័យ មានវារៈ១ ។*

*(៣២៨) ធម៌ ប្រព្រឹត្តទៅជាមួយនឹងរណៈ ជាអកុសល ពឹងផ្អែក នឹងធម៌ មិនមែនប្រព្រឹត្តទៅជាមួយនឹងរណៈ មិនមែនជាអកុសល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។*

*(៣២៩) ក្នុងហេតុប្បច្ច័យ មានវារៈ១ ។*

*(៣៣០) ធម៌ មិនមានរណៈ ជាអព្យាកតៈ អាស្រ័យ នូវធម៌ មិនមែនប្រព្រឹត្តទៅជាមួយនឹងរណៈ មិនមែនជាអព្យាកតៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។*

[៣៣១] ហេតុ ទ្វេ ។

## នហេតុទុកវេទនាត្តិកេ

## ហេតុទុកវេទនាត្តិកំ(១)

[៣៣២] នហេតុំ នសុខាយ វេទនាយ សម្បយុត្តំ ធម្មំ បដិច្ច ហេតុ សុខាយ វេទនាយ សម្បយុត្តោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា នហេតុំ នសុខាយ វេទនាយ សម្បយុត្តំ ធម្មំ បដិច្ច នហេតុ សុខាយ វេទនាយ សម្បយុត្តោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា នហេតុំ នសុខាយ វេទនាយ សម្បយុត្តំ ធម្មំ បដិច្ច ហេតុ សុខាយ វេទនាយ សម្បយុត្តោ ច នហេតុ សុខាយ វេទនាយ សម្បយុត្តោ ច ធម្មា ឧប្បជ្ជន្តិ ហេតុប្បច្ចយា ។

[៣៣៣] ហេតុយា តីណិ ។

នហេតុ នទុក្ខាយ វេទនាយ-

សម្បយុត្តមូលំ តីណិយេវ ។

[៣៣៤] នហេតុំ នអទុក្ខមសុខាយ វេទនាយ សម្បយុត្តំ ធម្មំ បដិច្ច ហេតុ អទុក្ខមសុខាយ វេទនាយ សម្បយុត្តោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

---

១ ឱ. នហេតុទុក . . . វេទនាត្តិកំ ន ទិស្សតិ ។



[៣៣១] ក្នុងហេតុប្បច្ច័យ មានវារៈ ២ ។

## នហេតុទុកវេទនាត្តិកៈ

## ហេតុទុកវេទនាត្តិកៈ

[៣៣២] ធម៌ ជាហេតុ ប្រកបដោយសុខវេទនា អាស្រ័យនូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយសុខវេទនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ធម៌ មិនមែនជាហេតុ ប្រកបដោយសុខវេទនា អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយសុខវេទនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ធម៌ ជាហេតុ ប្រកបដោយសុខវេទនាក្តី ធម៌មិនមែនជាហេតុ ប្រកបដោយសុខវេទនាក្តី អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយសុខវេទនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[៣៣៣] ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

នហេតុនទុក្ខាយវេទនាយសម្បយុត្តមូល មានវារៈ ៣ ។

[៣៣៤] ធម៌ ជាហេតុ ប្រកបដោយអទុក្ខមសុខវេទនា អាស្រ័យនូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយអទុក្ខមសុខវេទនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៣៥) ហេតុយា តីណិ ។

## នហេតុទុកនវិបាកត្តិកេ
## ហេតុទុកវិបាកត្តិកំ(១)

(៣៣៦) នហេតុំ នវិបាកំ ធម្មំ បដិច្ច ហេតុ វិបាកោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៣៧) ហេតុយា តីណិ ។

(៣៣៨) នហេតុំ នវិបាកធម្មធម្មំ បច្ចយា ហេតុ វិបាកធម្មធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៣៩) ហេតុយា តីណិ ។

(៣៤០) នហេតុំ ននេវវិបាកនវិបាកធម្មធម្មំ បដិច្ច ហេតុ នេវវិបាកនវិបាកធម្មធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៤១) ហេតុយា តីណិ ។

១ ម. នហេតុទុក ... វិបាកត្តិកន្តិ ន ទិស្សតិ ។



(៣៣៥) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនវិបាកត្តិកៈ
## ហេតុទុកវិបាកត្តិកៈ

(៣៣៦) ធម៌ ជាហេតុ ជាវិបាក អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាវិបាក ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៣៧) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៣៨) ធម៌ មានវិបាកជាប្រក្រតី ជាហេតុ ពឹងផ្អែកនឹងធម៌ មិនមែនជាហេតុ មិនមែនជាមានវិបាកជាប្រក្រតី ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៣៩) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៤០) ធម៌ មិនមែនជាវិបាកទាំងមិនមែនជាមិនមានវិបាកជាប្រក្រតី ជាហេតុ អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាវិបាកទាំងមិនមែនជាមិនមានវិបាកជាប្រក្រតី មិនមែនជាហេតុ ទើបកើតឡើងព្រោះហេតុប្បច្ច័យ ។

(៣៤១) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកឧបាទិន្នុបាទានិយត្តិកេ
## ហេតុទុកឧបាទិន្នុបាទានិយត្តិកំ(១)

(៣៤៤) នហេតុ នឧបាទិន្នុបាទានិយោ ធម្មោ ហេតុស្ស ឧបាទិន្នុបាទានិយស្ស ធម្មស្ស អារម្មណប្បច្ចយេន បច្ចយោ ... នហេតុស្ស ឧបាទិន្នុបាទានិយស្ស ធម្មស្ស អារម្មណប្បច្ចយេន បច្ចយោ ... ហេតុស្ស ឧបាទិន្នុបាទានិយស្ស ច នហេតុស្ស ឧបាទិន្នុបាទានិយស្ស ច ធម្មស្ស អារម្មណប្បច្ចយេន បច្ចយោ ។ ននហេតុ នឧបាទិន្នុបាទានិយោ ធម្មោ នហេតុស្ស ឧបាទិន្នុបាទានិយស្ស ធម្មស្ស អារម្មណប្បច្ចយេន បច្ចយោ តីណិ ។

១ ឱ. នហេតុទុក ... ឧបាទិន្នុបាទានិយត្តិកន្តិ ន ទិស្សតិ ។



## នហេតុទុកឧបាទិន្នុបាទានិយត្តិកៈ
## ហេតុទុកឧបាទិន្នុបាទានិយត្តិកៈ

(៣៤៤) ធម៌ មិនមែនជាហេតុ មិនមែនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទាន, ជាបច្ច័យ នៃធម៌ ជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យកទាំងជាប្រយោជន៍ដល់ឧបាទាន ដោយអារម្មណប្បច្ច័យ ... ជាបច្ច័យ នៃធម៌ មិនមែនជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យកទាំងជាប្រយោជន៍ដល់ឧបាទាន ដោយអារម្មណប្បច្ច័យ ... ជាបច្ច័យ នៃធម៌ ជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទានផង មិនមែនជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យកទាំងជាប្រយោជន៍ដល់ឧបាទានផង ដោយអារម្មណប្បច្ច័យ ។ ធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទាន ជាបច្ច័យ នៃធម៌ មិនមែនជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទាន ដោយអារម្មណប្បច្ច័យ មានវារៈ ៣ ។

នហេតុ នឧបាទិន្នុបាទានិយោ ច ននហេតុ នឧបាទិន្នុបាទានិយោ ច ធម្មា ហេតុស្ស ឧបាទិន្នុបាទានិយស្ស ធម្មស្ស អារម្មណបច្ចយេន បច្ចយោ ។ តីណិ ។ ឆ បញ្ហា ។ សង្ខិត្តំ ។

(៣៤៣) នហេតុំ នអនុបាទិន្នុបាទានិយំ ធម្មំ បច្ចយា ហេតុ អនុបាទិន្នុបាទានិយោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៤៤) ហេតុយា តីណិ ។

(៣៤៥) នហេតុំ នអនុបាទិន្នអនុបាទានិយំ ធម្មំ បច្ចយា ហេតុ[1] អនុបាទិន្នអនុបាទានិយោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៤៦) ហេតុយា តីណិ ។

[1] ម. ហេតុំ ។



ធម៌ មិនមែនជាហេតុ មិនមែនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទានក្តី មិនមែនជាមិនមែនជាហេតុ មិនមែនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទានក្តី ជាបច្ច័យ នៃធម៌ ជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទាន ដោយអារម្មណប្បច្ច័យ មានវារៈ ៣ ។ បញ្ហាទាំង ៨ ។ សេចក្តីបំប្រួញ ។

(៣៤៣) ធម៌ ជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមមិនកាន់យក ទាំងជាប្រយោជន៍ដល់ឧបាទាន ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមមិនកាន់យកទាំងជាប្រយោជន៍ដល់ឧបាទាន ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៤៤) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៤៥) ធម៌ ជាហេតុ មានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមមិនកាន់យកទាំងមិនមែនជាប្រយោជន៍ដល់ឧបាទាន ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានកម្មប្រកបដោយកិលេសមានតណ្ហាជាដើមមិនកាន់យក ទាំងមិនជាប្រយោជន៍ដល់ឧបាទាន ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៤៦) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនសង្កិលិដ្ឋសង្កិលេសិកត្តិកេ
## ហេតុទុកសង្កិលិដ្ឋសង្កិលេសិកត្តិកំ[១]

(៣៦៧) នហេតុំ នសង្កិលិដ្ឋសង្កិលេសិកំ ធម្មំ បច្ចយា ហេតុ សង្កិលិដ្ឋសង្កិលេសិកោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៦៨) ហេតុយា តីណិ ។

(៣៦៩) នហេតុំ នអសង្កិលិដ្ឋអសង្កិលេសិកំ ធម្មំ បច្ចយា ហេតុ អសង្កិលិដ្ឋអសង្កិលេសិកោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៧០) ហេតុយា តីណិ ។

## នហេតុទុកនវិតក្កត្តិកេ
## ហេតុទុកវិតក្កត្តិកំ[២]

(៣៧១) នហេតុំ នសវិតក្កសវិចារំ ធម្មំ បដិច្ច ហេតុ សវិតក្កសវិចារោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

---

១ ម. នហេតុទុក . . . សង្កិលិដ្ឋសង្កិលេសិកត្តិកន្តិ ន ទិស្សតិ ។ ២ ម. នហេតុទុក . . . វិតក្កត្តិកន្តិ ន ទិស្សតិ ។



## នហេតុទុកនសង្កិលិដ្ឋសង្កិលេសិកត្តិកៈ
## ហេតុទុកសង្កិលិដ្ឋសង្កិលេសិកត្តិកៈ

(៣៦៧) ធម៌ ជាហេតុ ប្រកបដោយសេចក្តីសៅហ្មងផងគួរដល់សេចក្តីសៅហ្មង ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយសេចក្តីសៅហ្មងផងគួរដល់សេចក្តីសៅហ្មង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៦៨) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៦៩) ធម៌ ជាហេតុ មិនប្រកបដោយសេចក្តីសៅហ្មងផងមិនគួរដល់សេចក្តីសៅហ្មង ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនជាមិនប្រកបដោយសេចក្តីសៅហ្មងផងមិនគួរដល់សេចក្តីសៅហ្មង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៧០) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនវិតក្កត្តិកៈ
## ហេតុទុកវិតក្កត្តិកៈ

(៣៧១) ធម៌ ជាហេតុ ប្រកបដោយវិតក្កៈប្រកបដោយវិចារៈ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយវិតក្កៈប្រកបដោយវិចារៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៨២) ហេតុយា តីណិ ។

(៣៨៣) ន ហេតុំ ន អវិតក្កវិចារមត្តំ ធម្មំ បដិច្ច ហេតុ អវិតក្កវិចារមត្តោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៨៤) ហេតុយា តីណិ ។

(៣៨៥) ន ហេតុំ ន អវិតក្កអវិចារំ ធម្មំ បដិច្ច ហេតុ អវិតក្កអវិចារោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៨៦) ហេតុយា តីណិ ។

## នហេតុទុកនបីតិត្តិកេ
## ហេតុទុកបីតិត្តិកំ[១]

(៣៨៧) ន ហេតុំ ន បីតិសហគតំ ធម្មំ បដិច្ច ហេតុ បីតិសហគតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៨៨) ហេតុយា តីណិ ។

(៣៨៩) ន ហេតុំ ន សុខសហគតំ ធម្មំ បដិច្ច ហេតុ សុខសហគតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

១ ឱ. នហេតុទុក ... បីតិត្តិកន្តិ ន ទិស្សតិ ។



(៣៨២) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៨៣) ធម៌ ជាហេតុ មិនមានវិតក្កៈមានត្រឹមតែវិចារៈ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាមិនមានវិតក្កៈមានត្រឹមតែវិចារៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៨៤) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៨៥) ធម៌ ជាហេតុ មិនមានវិតក្កៈមិនមានវិចារៈ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាមិនមានវិតក្កៈមិនមានវិចារៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៨៦) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនបីតិត្តិកៈ
## ហេតុទុកបីតិត្តិកៈ

(៣៨៧) ធម៌ ជាហេតុ ប្រកបដោយបីតិ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយបីតិ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៨៨) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៨៩) ធម៌ ជាហេតុ ប្រកបដោយសុខ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយសុខ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៦០) ហេតុយា តីណិ ។

(៣៦១) ន ហេតុំ ន ឧបេក្ខាសហគតំ ធម្មំ បដិច្ច ហេតុ ឧបេក្ខាសហគតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៦២) ហេតុយា តីណិ ។

## នហេតុទុកនទស្សនត្តិកេ
## ហេតុទុកទស្សនត្តិកំ(១)

(៣៦៣) ន ហេតុំ ន ទស្សនេន បហាតព្វំ ធម្មំ បច្ចយា ហេតុ ទស្សនេន បហាតព្វោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៦៤) ហេតុយា តីណិ ។

(៣៦៥) ន ហេតុំ ន ភាវនាយ បហាតព្វំ ធម្មំ បច្ចយា ហេតុ ភាវនាយ បហាតព្វោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៦៦) ហេតុយា តីណិ ។

១ ម. នហេតុទុក ... ទស្សនត្តិកត្តិ ន ទិស្សតិ ។



(៣៦០) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៦១) ធម៌ ជាហេតុ ប្រកបដោយឧបេក្ខា អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយឧបេក្ខា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៦២) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនទស្សនត្តិកៈ
## ហេតុទុកទស្សនត្តិកៈ

(៣៦៣) ធម៌ ជាហេតុ ដែលត្រូវលះដោយទស្សនៈ ព្រោះផ្អែកនឹងធម៌ មិនមែនជាហេតុ មិនមែនត្រូវលះដោយទស្សនៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៦៤) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៦៥) ធម៌ ជាហេតុ ដែលត្រូវលះដោយភាវនា ព្រោះផ្អែកនឹងធម៌ មិនមែនជាហេតុ មិនមែនត្រូវលះដោយភាវនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៦៦) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៦៧) នហេតុំ ននេវទស្សនេន នភាវនាយ បហាតព្វំ ធម្មំ បដិច្ច នហេតុ នេវទស្សនេន នភាវនាយ បហាតព្វោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ននហេតុំ ននេវទស្សនេន នភាវនាយ បហាតព្វំ ធម្មំ បដិច្ច នហេតុ នេវទស្សនេន នភាវនាយ បហាតព្វោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ទុកមូលំ ឯកំ ។ សព្វត្ថ តីណិ ។

## នហេតុទុកនទស្សនេនបហាតព្វហេតុកត្តិកេ ហេតុទុកទស្សនេនបហាតព្វហេតុកត្តិកំ(១)

(៣៦៨) ននហេតុំ នទស្សនេន បហាតព្វហេតុកំ ធម្មំ បដិច្ច នហេតុ ទស្សនេន បហាតព្វហេតុកោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៦៩) ហេតុយា ឯកំ ។

(៣៧០) ននហេតុំ នភាវនាយ បហាតព្វហេតុកំ ធម្មំ បដិច្ច នហេតុ ភាវនាយ បហាតព្វហេតុកោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៧១) ហេតុយា ឯកំ ។

១ ម. នហេតុទុក ... ទស្សនេនបហាតព្វហេតុកត្តិកត្តំ ន ទិស្សតិ ។



(៣៦៧) ធម៌ មិនមែនជាហេតុ មិនមែនត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាមិនត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ធម៌ មិនមែនជាហេតុ មិនមែនត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនជាមិនត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ទុកមូល មានវារៈ ១ ។ ក្នុងបទទាំងអស់ មានវារៈ ៣ ។

## នហេតុទុកនទស្សនេនបហាតព្វហេតុកត្តិកៈ ហេតុទុកទស្សនេនបហាតព្វហេតុកត្តិកៈ

(៣៦៨) ធម៌ មិនមែនជាហេតុ មានហេតុត្រូវលះដោយទស្សនៈ អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនមានហេតុត្រូវលះដោយទស្សនៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៦៩) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

(៣៧០) ធម៌ មិនមែនជាហេតុ មានហេតុត្រូវលះដោយភាវនា អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនមានហេតុត្រូវលះដោយភាវនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៧១) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

[៣៧២] នហេតុំ នេវទស្សនេន នភាវនាយ-បហាតព្វហេតុកំ ធម្មំ បដិច្ច នហេតុ នេវទស្ស-នេន នភាវនាយ បហាតព្វហេតុកោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ននហេតុំ នេវទស្សនេន នភា-វនាយ បហាតព្វហេតុកំ ធម្មំ បដិច្ច នហេតុ នេវ-ទស្សនេន នភាវនាយ បហាតព្វហេតុកោ ធម្មោ ឧប្ប-ជ្ជតិ ហេតុប្បច្ចយា ។ គណិតកេន តីណិ ។

## នហេតុទុកអាចយគាមិត្តិកេ
## ហេតុទុកអាចយគាមិត្តិកំ(១)

[៣៧៣] នហេតុំ នអាចយគាមឹ ធម្មំ បច្ចយា ហេតុ អាចយគាមី ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[៣៧៤] ហេតុយា តីណិ ។

[៣៧៥] នហេតុំ នអបចយគាមឹ ធម្មំ បច្ចយា ហេតុ អបចយគាមី ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[៣៧៦] ហេតុយា តីណិ ។

១ ឱ. នហេតុទុក .. អាចយគាមិត្តិកត្តិ ន ទិស្សតិ ។





(៣៧២) ធម៌ មិនមែនជាហេតុ មិនមែនមានហេតុត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា អាស្រ័យនូវធម៌ មិនមែនជាហេតុ មិនមែនជាមិនមានហេតុត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ធម៌ មិនមែនជាហេតុ មិនមែនមានហេតុត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា អាស្រ័យនូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនជាមិនមានហេតុត្រូវលះដោយទស្សនៈ ទាំងមិនមែនត្រូវលះដោយភាវនា ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ដោយការរាប់ មានបទៈ ៣ ។

## នហេតុទុកអាចយគាមិត្តិកៈ
## ហេតុទុកអាចយគាមិត្តិកៈ

(៣៧៣) ធម៌ ជាហេតុ ដល់នូវការសន្សំកព្ភូនឡើង ពឹងផ្អែកនឹងធម៌ មិនមែនជាហេតុ មិនមែនដល់នូវការសន្សំកព្ភូនឡើង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៧៤) ក្នុងហេតុប្បច្ច័យ មានបទៈ ៣ ។

(៣៧៥) ធម៌ ជាហេតុ មិនដល់នូវការសន្សំកព្ភូនឡើង ពឹងផ្អែកនឹងធម៌ មិនមែនជាហេតុ មិនមែនជាមិនដល់នូវការសន្សំកព្ភូនឡើង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៧៦) ក្នុងហេតុប្បច្ច័យ មានបទៈ ៣ ។

(៣៧៧) នហេតុំ ននេវាចយគាមិនាបចយ-គាមិំ ធម្មំ បដិច្ច នហេតុ នេវាចយគាមិនាបចយគាមី ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ននហេតុំ ននេវាចយគាមិនាបចយគាមិំ ធម្មំ បដិច្ច នហេតុ នេវាចយគាមិនាបចយគាមី ធម្មោ ឧប្បជ្ជតិ ហេតុ-បច្ចយា ។ ឃដិតកេន តីណិ ។

## នហេតុទុកនសេក្ខត្តិកេ
## ហេតុទុកសេក្ខត្តិកំ[១]

(៣៧៨) នហេតុំ នសេក្ខំ ធម្មំ បច្ចយា ហេតុ សេក្ខោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៧៩) ហេតុយា តីណិ ។

(៣៨០) នហេតុំ នអសេក្ខំ ធម្មំ បច្ចយា ហេតុ អសេក្ខោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៨១) ហេតុយា តីណិ ។

១ ម. នហេតុទុក ... សេក្ខត្តិកន្តិ ន ទិស្សតិ ។



(៣៧៧) ធម៌ មិនមែនជាហេតុ មិនមែនដល់នូវការសន្សំកពូនឡើង ទាំងមិនមែនជាមិនដល់នូវការសន្សំកពូនឡើង អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាមិនមែនដល់នូវការសន្សំកពូនឡើង ទាំងមិនមែនជាមិនដល់ នូវការសន្សំកពូនឡើង ទើបកើតឡើង ព្រោះហេតុ-ប្បច្ច័យ ។ ធម៌ មិនមែនជាហេតុ មិនមែនដល់នូវការសន្សំកពូនឡើង ទាំងមិនមែនជាមិនដល់ នូវការសន្សំកពូនឡើង អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនជាមិនមែនជាដល់នូវការសន្សំកពូនឡើង ទាំងមិនមែនជាមិនដល់ នូវការសន្សំកពូនឡើង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ដោយការភ្ជាប់ មានវារៈ ៣ ។

## នហេតុទុកនសេក្ខត្តិកៈ
## ហេតុទុកសេក្ខត្តិកៈ

(៣៧៨) ធម៌ ជាហេតុ ជាសេក្ខៈ ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនជាសេក្ខៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៧៩) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៨០) ធម៌ ជាហេតុ ជាអសេក្ខៈ ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនជាអសេក្ខៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៨១) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៨២) ន ហេតុំ ន នេវសេក្ខានាសេក្ខំ ធម្មំ បដិច្ច ន ហេតុ នេវសេក្ខានាសេក្ខោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ន ន ហេតុំ ន នេវសេក្ខានាសេក្ខំ ធម្មំ បដិច្ច ន ហេតុ នេវសេក្ខានាសេក្ខោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ គណិតកេន តីណិ ។

## នហេតុទុកនបរិត្តត្តិកេ
## ហេតុទុកបរិត្តត្តិកំ[១]

(៣៨៣) ន ហេតុំ ន បរិត្តំ ធម្មំ បដិច្ច ន ហេតុ បរិត្តោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ន ន ហេតុំ ន បរិត្តំ ធម្មំ បដិច្ច ន ហេតុ បរិត្តោ ធម្មោ ឧប្ប-ជ្ជតិ ហេតុប្បច្ចយា ។ គណិតកេន តីណិ ។

(៣៨៤) ន ហេតុំ ន មហគ្គតំ ធម្មំ បច្ចយា ហេតុ មហគ្គតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៨៥) ហេតុយា តីណិ ។

១ ម. នហេតុទុក ... បរិត្តត្តិកន្តិ ន ទិស្សតិ ។





*(៣៨២) ធម៌ មិនមែនជាហេតុ មិនមែនជាសេក្ខៈទាំងមិនមែនជាអសេក្ខៈ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាមិនមែនជាសេក្ខៈទាំងមិនមែនជាអសេក្ខៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ធម៌ មិនមែនជាហេតុ មិនមែនជាសេក្ខៈទាំងមិនមែនជាអសេក្ខៈ អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនជាមិនមែនជាសេក្ខៈ ទាំងមិនមែនជាសេក្ខៈ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ដោយការរាប់ មានវារៈ ៣ ។*

## នហេតុទុកនបរិត្តត្តិកៈ
## ហេតុទុកបរិត្តត្តិកៈ

*(៣៨៣) ធម៌ មិនមែនជាហេតុ មានអារម្មណ៍តូចឆ្មារ អា-ស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍តូចឆ្មារ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ធម៌ មិនមែនជាហេតុ មានអារម្មណ៍តូចឆ្មារ អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនមានអារម្មណ៍តូចឆ្មារ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ដោយការរាប់ មានវារៈ ៣ ។*

*(៣៨៤) ធម៌ ជាហេតុ ដល់នូវសភាពធំ ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនដល់នូវសភាពធំ ទើបកើតឡើង ព្រោះហេតុ-ប្បច្ច័យ ។*

*(៣៨៥) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។*

(៣៨៦) នហេតុំ នអប្បមាណំ ធម្មំ បច្ចយា ហេតុ អប្បមាណោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៨៧) ហេតុយា តីណិ ។

## នហេតុទុកនបរិត្តារម្មណត្តិកេ
## ហេតុទុកបរិត្តារម្មណត្តិកំ[1]

(៣៨៨) នហេតុំ នបរិត្តារម្មណំ ធម្មំ បច្ចយា ហេតុ បរិត្តារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៨៩) ហេតុយា តីណិ ។

(៣៩០) នហេតុំ នមហគ្គតារម្មណំ ធម្មំ បច្ចយា ហេតុ មហគ្គតារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៩១) ហេតុយា តីណិ ។

(៣៩២) នហេតុំ នអប្បមាណារម្មណំ ធម្មំ បច្ចយា ហេតុ អប្បមាណារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៣៩៣) ហេតុយា តីណិ ។

១ ម. នហេតុទុកនបរិត្តារម្មណត្តិកេ ហេតុទុកបរិត្តារម្មណត្តិកន្តិ ន ទិស្សតិ ។



(៣៨៦) ធម៌ ជាហេតុ ប្រមាណមិនបាន ក៏ផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនជាប្រមាណមិនបាន ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៨៧) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនបរិត្តារម្មណត្តិកៈ
## ហេតុទុកបរិត្តារម្មណត្តិកៈ

(៣៨៨) ធម៌ ជាហេតុ មានអារម្មណ៍តូចឆ្មារ ក៏ផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍តូចឆ្មារ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៨៩) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៩០) ធម៌ ជាហេតុ មានអារម្មណ៍ដល់នូវសភាពធំ ក៏ផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍ដល់នូវសភាពធំ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៩១) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៩២) ធម៌ ជាហេតុ មានអារម្មណ៍រកប្រមាណមិនបាន ក៏ផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍រកប្រមាណមិនបាន ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៩៣) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនហីនត្តិកេ

## ហេតុទុកហីនត្តិកំ[១]

(៣៩៤) នហេតុំ នហីនំ ធម្មំ បច្ចយា ហេតុ ហីនោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៩៥) ហេតុយា តីណិ ។

(៣៩៦) នហេតុំ នមជ្ឈិមំ ធម្មំ បដិច្ច នហេតុ មជ្ឈិមោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ននហេតុំ នមជ្ឈិមំ ធម្មំ បដិច្ច នហេតុ មជ្ឈិមោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ គណិតកេន តីណិ ។

(៣៩៧) នហេតុំ នបណីតំ ធម្មំ បច្ចយា ហេតុ បណីតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៣៩៨) ហេតុយា តីណិ ។

## នហេតុទុកនមិច្ឆត្តត្តិកេ

## ហេតុទុកមិច្ឆត្តត្តិកំ[២]

(៣៩៩) នហេតុំ នមិច្ឆត្តនិយតំ ធម្មំ បច្ចយា ហេតុ មិច្ឆត្តនិយតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

---

១ ឱ. នហេតុទុកនហីនត្តិកេ ហេតុទុកហីនត្តិកន្តិ ន ទិស្សតិ ។ ២. ឱ. នហេតុទុកនមិច្ឆត្តត្តិកេ ហេតុទុកមិច្ឆត្តត្តិកន្តិ ន ទិស្សតិ ។





## នហេតុទុកនហីនត្តិកៈ

## ហេតុទុកហីនត្តិកៈ

(៣៩៤) ធម៌ ជាហេតុ ថោកថយ ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនជាថោកថយ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៩៥) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៣៩៦) ធម៌ មិនមែនជាហេតុ ជាកណ្តាល អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាកណ្តាល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ ធម៌ មិនមែនជាហេតុ ជាកណ្តាល អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនជាកណ្តាល ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ មានវារៈ ៣ ដោយបទដែលគួរគប់ ។

(៣៩៧) ធម៌ ជាហេតុ ដ៏ឧត្តម ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនឧត្តម ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៣៩៨) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនមិច្ឆត្តត្តិកៈ

## ហេតុទុកមិច្ឆត្តត្តិកៈ

(៣៩៩) ធម៌ ជាហេតុ មានសភាពខុសនិងទៀង ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានសភាពខុសនិងទៀង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦០០) ហេតុយា តីណិ ។

(៦០១) នហេតុំ នសម្មត្តនិយតំ ធម្មំ បច្ចយា ហេតុ សម្មត្តនិយតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៦០២) ហេតុយា តីណិ ។

(៦០៣) នហេតុំ នអនិយតំ ធម្មំ បដិច្ច ន-ហេតុ អនិយតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ ន នហេតុំ នអនិយតំ ធម្មំ បដិច្ច នហេតុ អនិយតោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។ គណិតកេន តីណិ ។

## នហេតុទុកនមគ្គារម្មណត្តិកេ
## ហេតុទុកមគ្គារម្មណត្តិកំ(១)

(៦០៤) នហេតុំ នមគ្គារម្មណំ ធម្មំ បច្ចយា ហេតុ មគ្គារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៦០៥) ហេតុយា តីណិ ។

(៦០៦) នហេតុំ នមគ្គហេតុកំ ធម្មំ បច្ចយា ហេតុ មគ្គហេតុកោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

១ ម. នហេតុទុកនមគ្គារម្មណត្តិកេ ហេតុទុកមគ្គារម្មណត្តិកន្តិ ន ទិស្សតិ ។



(៦០០) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៦០១) ធម៌ ជាហេតុ មានសភាពត្រូវនិងទៀង ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានសភាពត្រូវនិងទៀង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦០២) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៦០៣) ធម៌ មិនមែនជាហេតុ មិនទៀង អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាមិនទៀង ទើបកើតឡើង ព្រោះហេតុ-ប្បច្ច័យ ។ ធម៌ មិនមែនជាហេតុ មិនទៀង អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនជាមិនទៀង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។ មានវារៈ ៣ ដោយបទរាប់ ។

## នហេតុទុកនមគ្គារម្មណត្តិកៈ
## ហេតុទុកមគ្គារម្មណត្តិកៈ

(៦០៤) ធម៌ ជាហេតុ មានមគ្គជាអារម្មណ៍ ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានមគ្គជាអារម្មណ៍ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦០៥) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៦០៦) ធម៌ ជាហេតុ មានមគ្គជាហេតុ ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានមគ្គជាហេតុ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦០៧) ហេតុយា តីណិ ។

(៦០៨) ន ហេតុំ ន មគ្គាធិបតិំ ធម្មំ បច្ចយា ហេតុ មគ្គាធិបតិ ធម្មោ ឧប្បជ្ជតិ ហេតុបច្ចយា ។

(៦០៩) ហេតុយា តីណិ ។

## នហេតុទុកនឧប្បន្នត្តិកេ
## ហេតុទុកឧប្បន្នត្តិកំ[១]

(៦១០) ន ហេតុ ន ឧប្បន្នោ ធម្មោ ហេតុស្ស ឧប្បន្នស្ស ធម្មស្ស អារម្មណបច្ចយេន បច្ចយោ ។

(៦១១) អារម្មណេ នវ ។

## នហេតុទុកនអតីតត្តិកេ
## ហេតុទុកអតីតត្តិកំ[២]

(៦១២) ន ហេតុ ន បច្ចុប្បន្នោ ធម្មោ ហេតុស្ស បច្ចុប្បន្នស្ស ធម្មស្ស អារម្មណបច្ចយេន បច្ចយោ ។

(៦១៣) អារម្មណេ នវ ។

១ ម. នហេតុទុកនឧប្បន្នត្តិកេ ហេតុទុកឧប្បន្នត្តិកន្តិ ន ទិស្សតិ ។ ២ ម. នហេតុទុក . . . អតីតត្តិកន្តិ ន ទិស្សតិ ។



(៦០៧) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៦០៨) ធម៌ ជាហេតុ មានមគ្គជាអធិបតី ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានមគ្គជាអធិបតី ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦០៩) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

## នហេតុទុកនឧប្បន្នត្តិកៈ
## ហេតុទុកឧប្បន្នត្តិកៈ

(៦១០) ធម៌ មិនមែនជាហេតុ មិនមែនកើតឡើងហើយ ជាបច្ច័យ នៃធម៌ ជាហេតុ ដែលកើតឡើងហើយ ដោយអារម្មណប្បច្ច័យ ។

(៦១១) ក្នុងអារម្មណប្បច្ច័យ មានវារៈ ៩ ។

## នហេតុទុកនអតីតត្តិកៈ
## ហេតុទុកអតីតត្តិកៈ

(៦១២) ធម៌ មិនមែនជាហេតុ មិនមែនជាបច្ចុប្បន្ន ជាបច្ច័យ នៃធម៌ ជាហេតុ ជាបច្ចុប្បន្ន ដោយអារម្មណប្បច្ច័យ ។

(៦១៣) ក្នុងអារម្មណប្បច្ច័យ មានវារៈ ៩ ។

## នហេតុទុកនអតីតារម្មណត្តិកេ

## ហេតុទុកអតីតារម្មណត្តិកំ[១]

(៦១៤) ន ហេតុំ ន អតីតារម្មណំ ធម្មំ បដិច្ច ហេតុ អតីតារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៦១៥) ហេតុយា តីណិ ។

(៦១៦) ន ហេតុំ ន អនាគតារម្មណំ ធម្មំ បច្ចយា ហេតុ អនាគតារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៦១៧) ហេតុយា តីណិ ។

(៦១៨) ន ហេតុំ ន បច្ចុប្បន្នារម្មណំ ធម្មំ បដិច្ច ហេតុ បច្ចុប្បន្នារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៦១៩) ហេតុយា តីណិ ។

អជ្ឈត្តិកោ ន លព្ភតិ ។

## នហេតុទុកនអជ្ឈត្តារម្មណត្តិកេ

## ហេតុទុកអជ្ឈត្តារម្មណត្តិកំ[២]

(៦២០) ន ហេតុំ ន អជ្ឈត្តារម្មណំ ធម្មំ បច្ចយា

---

១ ម. នហេតុទុក ... អជ្ឈត្តារម្មណត្តិកទ្វិ ន ទិស្សតិ ។ ២ ម. នហេតុទុក ... អតីតារម្មណត្តិកទ្វិ ន ទិស្សតិ ។



## នហេតុទុកនអតីតារម្មណត្តិកៈ

## ហេតុទុកអតីតារម្មណត្តិកៈ

(៦១៤) ធម៌ ជាហេតុ មានអារម្មណ៍ជាអតីត អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍ជាអតីត ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦១៥) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៦១៦) ធម៌ ជាហេតុ មានអារម្មណ៍ជាអនាគត ពឹងផ្អែក នូវធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍ជាអនាគត ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦១៧) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៦១៨) ធម៌ ជាហេតុ មានអារម្មណ៍ជាបច្ចុប្បន្ន អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍ជាបច្ចុប្បន្ន ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦១៩) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។ ធម៌ ប្រព្រឹត្តទៅខាងក្នុង បណ្ឌិត មិនបានសំដៅយកទេ ។

## នហេតុទុកនអជ្ឈត្តារម្មណត្តិកៈ

## ហេតុទុកអជ្ឈត្តារម្មណត្តិកៈ

(៦២០) ធម៌ ជាហេតុ មានអារម្មណ៍ខាងក្នុង ពឹងផ្អែក នូវធម៌

ហេតុ អជ្ឈត្តារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៦២១) ហេតុយា តីណិ ។

(៦២២) នហេតុំ នពហិទ្ធារម្មណំ ធម្មំ បច្ចយា ហេតុ ពហិទ្ធារម្មណោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៦២៣) ហេតុយា តីណិ ។

អជ្ឈត្តពហិទ្ធារម្មណំ នត្ថិ ។

## នហេតុទុកសនិទស្សនត្តិកេ

## ហេតុទុកសនិទស្សនត្តិកំ(១)

(៦២៤) នហេតុំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច នហេតុ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ ននហេតុំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច នហេតុ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ គណិតកេន តីណិ បញ្ហា ។ នហេតុនអនិទស្សនសប្បដិឃមូលេបិ តីណិយេវ ។

១ ម. នហេតុទុក នសនិទស្សនត្តិកេ ហេតុទុក សនិទស្សនត្តិកន្តិ ន ទិស្សតិ ។



មិនមែនជាហេតុ មិនមែនមានអារម្មណ៍ខាងក្នុង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦២១) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

(៦២២) ធម៌ ជាហេតុ មានអារម្មណ៍ខាងក្រៅ ពឹងផ្អែក នឹងធម៌ មិនមែនជាហេតុ មិនមែនមានអារម្មណ៍ខាងក្រៅ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦២៣) ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

អារម្មណ៍ខាងក្នុង និងខាងក្រៅ មិនមានទេ ។

## នហេតុទុកសនិទស្សនត្តិកៈ

## ហេតុទុកសនិទស្សនត្តិកៈ

(៦២៤) ធម៌ មិនមែនជាហេតុ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ១ ។ ធម៌ មិនមែនជាហេតុ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាហេតុ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ១ ។ ប្រស្នា ៣ ដោយបទដែលគួររាប់ ។ ក្នុងនហេតុនអនិទស្សនសប្បដិឃមូល មានវារៈ ៣ ។

(៤២៥) ន ហេតុំ ន អនិទស្សនអប្បដិឃំ ធម្មំ បដិច្ច នហេតុ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៤២៦) ហេតុយា ឯកំ ។

## នសហេតុកទុកនសនិទស្សនត្តិកេ
## សហេតុកទុកសនិទស្សនត្តិកំ(១)

(៤២៧) ន សហេតុកំ ន សនិទស្សនសប្បដិឃំ ធម្មំ បដិច្ច អហេតុកោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ ន អហេតុកំ ន សនិទស្សនសប្បដិឃំ ធម្មំ បដិច្ច អហេតុកោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ គណិតកេន តីណិ បញ្ហា ។ ន សហេតុកនអនិទស្សនសប្បដិឃមូលេបិ តីណិយេវ ។

(៤២៨) ន សហេតុកំ ន អនិទស្សនអប្បដិឃំ ធម្មំ បដិច្ច អហេតុកោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

១ ម. នសហេតុកទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។



(៤២៥) ធម៌ មិនមែនជាហេតុ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាហេតុ មិនមែនជាមិនមានការឃើញនិងមិនមានប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៤២៦) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នសហេតុកទុកនសនិទស្សនត្តិកៈ
## សហេតុកទុកសនិទស្សនត្តិកៈ

(៤២៧) ធម៌ មិនមានហេតុ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយហេតុ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ ធម៌ មិនមានហេតុ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានហេតុ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ តាមន័យដែលបានរាប់ហើយ មានប្រស្នា ៣ ។ ក្នុងសហេតុកនអនិទស្សនសប្បដិឃមូល មានវារៈ ៣ ។

(៤២៨) ធម៌ មិនមានហេតុ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយហេតុ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៦២៩) ហេតុយា ឯកំ ។

នហេតុសម្បយុត្តំ នសនិទស្សនសប្បដិឃំ សហេតុកទុកសទិសំ តីណិ បញ្ហា ។

ហេតុចេវសហេតុកទុកហេតុចេវហេតុសម្បយុត្តទុកមគ្គញ្ញិ បញ្ហា(១) ន លព្ភតិ ។

## នហេតុនសហេតុកទុកនសនិទស្សនត្តិកេ

## នហេតុសហេតុកទុកសនិទស្សនត្តិកំ(២)

(៦៣០) នហេតុំ នសហេតុកំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច នហេតុអហេតុកោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា(៣) ឯកំ ។ នហេតុំ នអហេតុកំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច នហេតុអហេតុកោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ ឃដិតកេន តីណិ ។

(៦៣១) នហេតុំ នសហេតុកំ នអនិទស្សនសប្បដិឃំ ធម្មំ បដិច្ច ... ។ តីណិយេវ ។

១ ម. បញ្ហា ។ ២ ម. នហេតុនសហេតុកទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។
៣ ម. ហេតុប្បច្ចយា ហេតុយា ឯកំ ។



(៦២៩) ក្នុងហេតុប្បច្ច័យ មានវារៈ១ ។

នហេតុសម្បយុត្តនសនិទស្សនសប្បដិឃៈ ប្រហែលគ្នានឹងសហេតុកទុកៈ មានប្រស្នា ៣ ។

ហេតុចេវសហេតុកទុកៈ ហេតុចេវហេតុសម្បយុត្តទុកៈ បណ្ឌិតមិនបានសំដៅយកក្នុងប្រស្នាទេ ។

## នហេតុនសហេតុកទុកនសនិទស្សនត្តិកៈ

## នហេតុសហេតុកទុកសនិទស្សនត្តិកៈ

(៦៣០) ធម៌ មិនមែនជាហេតុផងមិនមានហេតុ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាហេតុផងមិនមែនប្រកបដោយហេតុ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ ធម៌ មិនមែនជាហេតុផងមិនមានហេតុ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាហេតុផងមិនមែនជាមិនមានហេតុ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ តាមន័យដែលបានពោលហើយ មានវារៈ៣ ។

(៦៣១) អាស្រ័យ នូវធម៌ មិនមែនជាហេតុផងមិនមែនប្រកបដោយហេតុ មិនមែនជាមិនមានការឃើញតែប្រកបដោយការប៉ះពាល់ ... ។ មានវារៈ៣ ។

(៤៣២) នហេតុំ នសហេតុកំ នអនិទស្សននអប្បដិឃំ ធម្មំ បដិច្ច នហេតុអហេតុកោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៤៣៣) ហេតុយា ឯកំ ។

## នសប្បច្ចយទុកនសនិទស្សនត្តិកេ
## សប្បច្ចយទុកសនិទស្សនត្តិកំ[១]

(៤៣៤) នអប្បច្ចយំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច សប្បច្ចយោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៤៣៥) ហេតុយា ឯកំ ។

(៤៣៦) នអប្បច្ចយំ នអនិទស្សនសប្បដិឃំ ធម្មំ បដិច្ច សប្បច្ចយោ អនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៤៣៧) ហេតុយា ឯកំ ។

នអប្បច្ចយនអនិទស្សនអប្បដិឃម្បិ ឯកមេវ ។ នសង្ខតំ នសប្បច្ចយសទិសំ ។

១- ឱ. នសប្បច្ចយទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។



(៤៣២) ធម៌ មិនមែនជាហេតុផងមិនមានហេតុ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាហេតុផងមិនមែនប្រកបដោយហេតុ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៤៣៣) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នសប្បច្ចយទុកនសនិទស្សនត្តិកៈ
## សប្បច្ចយទុកសនិទស្សនត្តិកៈ

(៤៣៤) ធម៌ ប្រកបដោយបច្ច័យ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានបច្ច័យ មិនមែនប្រកបដោយការឃើញ និងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៤៣៥) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

(៤៣៦) ធម៌ ប្រកបដោយបច្ច័យ មិនមានការឃើញតែប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានបច្ច័យ មិនមែនជាមិនមានការឃើញតែប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៤៣៧) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។ សូម្បីក្នុងនអប្បច្ចយនអនិទស្សនអប្បដិឃមូល មានវារៈ ១ ។ នសង្ខតធម៌ ប្រហែលគ្នានឹងនសប្បច្ចយធម៌នោះ ។

## នសនិទស្សនទុកនសនិទស្សនត្តិកេ
## សនិទស្សនទុកសនិទស្សនត្តិកំ(១)

[៦៣៨] នសនិទស្សនំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច សនិទស្សនោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[៦៣៩] ហេតុយា ឯកំ ។

[៦៤០] នសនិទស្សនំ នអនិទស្សនសប្បដិឃំ ធម្មំ បដិច្ច អនិទស្សនោ អនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[៦៤១] ហេតុយា ឯកំ ។

[៦៤២] នសនិទស្សនំ នអនិទស្សនអប្បដិឃំ ធម្មំ បដិច្ច អនិទស្សនោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[៦៤៣] ហេតុយា ឯកំ ។

---

១ ម.ន សនិទស្សនទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។



## នសនិទស្សនទុកនសនិទស្សនត្តិកៈ
## សនិទស្សនទុកសនិទស្សនត្តិកៈ

[៦៣៨] ធម៌ ប្រកបដោយការឃើញ ប្រកបដោយការឃើញ និងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយការឃើញ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[៦៣៩] ក្នុងហេតុប្បច្ច័យ មាននយៈ ១ ។

[៦៤០] ធម៌ មិនមានការឃើញ មិនមានការឃើញតែប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយការឃើញ មិនមែនជាមិនមានការឃើញតែប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[៦៤១] ក្នុងហេតុប្បច្ច័យ មាននយៈ ១ ។

[៦៤២] ធម៌ មិនមានការឃើញ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយការឃើញ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[៦៤៣] ក្នុងហេតុប្បច្ច័យ មាននយៈ ១ ។

## នសប្បដិឃទុកនសនិទស្សនត្តិកេ
## សប្បដិឃទុកសនិទស្សនត្តិកំ(១)

[៤៤៤] នសប្បដិឃំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច សប្បដិឃោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ នអប្បដិឃំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច អប្បដិឃោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ នសប្បដិឃំ នសនិទស្សនសប្បដិឃញ្ច នអប្បដិឃំ នសនិទស្សនសប្បដិឃញ្ច ធម្មំ បដិច្ច សប្បដិឃោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ សព្វត្ថ តីណិ ។

[៤៤៥] នសប្បដិឃំ នអនិទស្សនសប្បដិឃំ ធម្មំ បដិច្ច សប្បដិឃោ អនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

១ នសប្បដិឃទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។



## នសប្បដិឃទុកនសនិទស្សនត្តិកៈ
## សប្បដិឃទុកសនិទស្សនត្តិកៈ

[៤៤៤] ធម៌ ប្រកបដោយការប៉ះពាល់ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយការប៉ះពាល់ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ១ ។ ធម៌ មិនមានការប៉ះពាល់ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានការប៉ះពាល់ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ១ ។ ធម៌ ប្រកបដោយការប៉ះពាល់ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយការប៉ះពាល់ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ផង មិនមែនជាមិនមានការប៉ះពាល់ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ផង ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ១ ។ ក្នុងបទទាំងពួង មានវារៈ ៣ ។

[៤៤៥] ធម៌ ប្រកបដោយការប៉ះពាល់ មិនមានការឃើញ តែប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយការប៉ះពាល់ មិនមែនជាមិនមានការឃើញតែប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[ ៦៦៦ ] ហេតុយា ឯកំ ។

[ ៦៦៧ ] ន អប្បដិឃំ ន អនិទស្សនអប្បដិឃំ ធម្មំ បដិច្ច អប្បដិឃោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[ ៦៦៨ ] ហេតុយា ឯកំ ។

## នរូបីទុកនសនិទស្សនត្តិកំ
## រូបីទុកសនិទស្សនត្តិកំ[១]

[ ៦៦៩ ] នរូបឹ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច រូបី សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[ ៦៧០ ] ហេតុយា តីណិ ។

[ ៦៧១ ] នរូបឹ នអនិទស្សនសប្បដិឃំ ធម្មំ បដិច្ច រូបី អនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

[ ៦៧២ ] ហេតុយា តីណិ ។

[ ៦៧៣ ] នអរូបឹ នអនិទស្សនអប្បដិឃំ ធម្មំ បដិច្ច រូបី អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

១ ម. នរូបីទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។





[ ៦៦៦ ] ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

[ ៦៦៧ ] ធម៌ មិនមានការប៉ះពាល់ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានការប៉ះពាល់ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[ ៦៦៨ ] ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នរូបីទុកនសនិទស្សនត្តិកៈ
## រូបីទុកសនិទស្សនត្តិកៈ

[ ៦៦៩ ] ធម៌ មានរូប ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមានរូប មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[ ៦៧០ ] ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

[ ៦៧១ ] ធម៌ មានរូប មិនមានការឃើញតែប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមានរូប មិនមែនជាមិនមានការឃើញតែប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[ ៦៧២ ] ក្នុងហេតុប្បច្ច័យ មានវារៈ ៣ ។

[ ៦៧៣ ] ធម៌ មានរូប មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានរូប មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៤៨៤) ហេតុយា ឯកំ ។

## នលោកិយទុកនសនិទស្សនត្តិកេ លោកិយទុកសនិទស្សនត្តិកំ(១)

(៤៨៥) នលោកិយំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច លោកិយោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ នលោកុត្តរំ(២) នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច លោកិយោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ គណិតកេន កាតព្វា តីណិ បញ្ហា ។

(៤៨៦) នលោកិយំ នអនិទស្សនសប្បដិឃំ ធម្មំ បដិច្ច លោកិយោ អនិទស្សនសប្បដិឃោ...។ តីណិយេវ(៣) បញ្ហា កាតព្វា ។

(៤៨៧) នលោកុត្តរំ នអនិទស្សនអប្បដិឃំ ធម្មំ បដិច្ច លោកិយោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

១ ម. នលោកិយទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។ ២ ម. នលោកុត្តរំ ។ ៣ ម. តីណិយេវ បញ្ហា កាតព្វា ។



(៤៨៤) ក្នុងហេតុប្បច្ច័យ មានន័យ ១ ។

## នលោកិយទុកនសនិទស្សនត្តិកៈ លោកិយទុកសនិទស្សនត្តិកៈ

(៤៨៥) ធម៌ ជាលោកិយ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាលោកិយ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានន័យ ១ ។ ធម៌ ជាលោកិយ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមែនជាលោកុត្តរៈ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានន័យ ១ ។ ប្រស្នា ៣ បណ្ឌិតគប្បីរាប់ ដោយបទដែលគួររាប់ផងចុះ ។

(៤៨៦) ធម៌ ជាលោកិយ មិនមានការឃើញតែប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាលោកិយ មិនមែនជាមិនមានការឃើញតែប្រកបដោយការប៉ះពាល់ ...។ ប្រស្នា ៣ បណ្ឌិតគប្បីធ្វើផងចុះ ។

(៤៨៧) ធម៌ ជាលោកិយ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាលោកុត្តរៈ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

[៤៩៨] ហេតុយា ឯកំ ។

## នកេនចិវិញ្ញេយ្យទុកនសនិទស្សនត្តិកេ
## កេនចិវិញ្ញេយ្យទុកសនិទស្សនត្តិកំ(១)

[៤៩៩] នកេនចិវិញ្ញេយ្យំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច កេនចិវិញ្ញេយ្យោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ... កេនចិវិញ្ញេយ្យោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ... កេនចិវិញ្ញេយ្យោ សនិទស្សនសប្បដិឃោ ច នកេនចិវិញ្ញេយ្យោ(២) សនិទស្សនសប្បដិឃោ ច ធម្មា ឧប្បជ្ជន្តិ ហេតុប្បច្ចយា(៣) តីណិ ។ នកេនចិវិញ្ញេយ្យំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច ... តីណិយេវ ។ នកេនចិវិញ្ញេយ្យំ នសនិទស្សនសប្បដិឃញ្ច នកេនចិវិញ្ញេយ្យំ នសនិទស្សនសប្បដិឃញ្ច ធម្មំ បដិច្ច ... តីណិយេវ ។

១ ម. នកេនចិវិញ្ញេយ្យទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។ ២ ម. កេនចិវិញ្ញេយ្យោ ។ ៣ ម. ហេតុប្បច្ចយា ហេតុយា តីណិ ។



[៤៩៨] ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នកេនចិវិញ្ញេយ្យទុកនសនិទស្សនត្តិកៈ
## កេនចិវិញ្ញេយ្យទុកសនិទស្សនត្តិកៈ

[៤៩៩] ធម៌ ដែលគួរដឹងច្បាស់ ដោយវិញ្ញាណណាណាមួយ ប្រកបដោយការឃើញ និងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ ដែលមិនមែនគួរដឹងច្បាស់ដោយវិញ្ញាណណាណាមួយ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ ដែលមិនគួរដឹងច្បាស់ដោយវិញ្ញាណណាណាមួយ ប្រកបដោយការឃើញ និងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ... ធម៌ ដែលគួរដឹងច្បាស់ ដោយវិញ្ញាណណាណាមួយ ប្រកបដោយការឃើញ និងប្រកបដោយការប៉ះពាល់ក្តី ដែលមិនគួរដឹងច្បាស់ដោយវិញ្ញាណណាណាមួយ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ក្តី ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ៣ ។ អាស្រ័យ នូវធម៌ ដែលមិនមែនជាមិនគួរដឹងច្បាស់ ដោយវិញ្ញាណណាណាមួយ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ... មានវារៈ ៣ ។ អាស្រ័យ នូវធម៌ ដែលមិនមែនគួរដឹងច្បាស់ដោយវិញ្ញាណណាណាមួយ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ផង មិនមែនជាមិនគួរដឹងច្បាស់ដោយវិញ្ញាណណាណាមួយ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ផង ... មានវារៈ ៣ ។

សព្វត្ថ នវ ។ នោកេនចិវិញ្ញេយ្យំ នអនិទស្សនសប្បដិឃស្ស បុរិមសទិសំ នវបញ្ហំ កាតព្វា[១] ។ នោកេនចិវិញ្ញេយ្យំ នអនិទស្សនអប្បដិឃមូលស្ស នវបញ្ហមេវ ។

## នោអាសវទុកនសនិទស្សនត្តិកេ

## អាសវទុកសនិទស្សនត្តិកំ[២]

( ៤២០ ) នោអាសវំ[៣] នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច នោអាសវោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ នោអាសវំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច នោអាសវោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ គណិតកេន តីណិ ។

( ៤២១ ) នោអាសវំ នអនិទស្សនសប្បដិឃំ ធម្មំ បដិច្ច... ។ បុរិមនយេន តីណិ បញ្ហា ។

( ៤២២ ) នោអាសវំ នអនិទស្សនអប្បដិឃំ ធម្មំ បដិច្ច នោអាសវោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

១ ម. កាតព្វំ ។ ២ ម. នោអាសវទុក ... សនិទស្សនត្តិកន្តិ ន ទិស្សតិ ។ ៣ ម. ន អាសវំ ។



ក្នុងបទទាំងពួង មានវារៈ៩ ។ នកេនចិវិញ្ញេយ្យនអនិទស្សនសប្បដិឃៈ មានប្រស្នា ៩ ប្រហែលគ្នានឹងលើកមុនដែរ បណ្ឌិតគប្បីធ្វើផងចុះ ។ នកេនចិវិញ្ញេយ្យនអនិទស្សនអប្បដិឃមូល មានប្រស្នា ៩ ។

## នោអាសវទុកនសនិទស្សនត្តិកៈ

## អាសវទុកសនិទស្សនត្តិកៈ

( ៤២០ ) ធម៌ មិនមែនជាអាសវៈ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យនូវធម៌ មិនមែនជាអាសវៈ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ ធម៌ មិនមែនជាអាសវៈ ប្រកបដោយការឃើញ និងប្រកបដោយការប៉ះពាល់ អាស្រ័យនូវធម៌ មិនមែនជាមិនមានអាសវៈ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ វារៈ៣ ដោយបទដែលគួររាប់ ។

( ៤២១ ) អាស្រ័យនូវធម៌ មិនមែនជាអាសវៈ មិនមែនជាមិនមានការឃើញ តែប្រកបដោយការប៉ះពាល់ . . . ។ ប្រស្នា ៣ ដោយន័យដូចមុន ។

( ៤២២ ) ធម៌ មិនមែនជាអាសវៈ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យនូវធម៌ មិនមែនជាអាសវៈ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

( ៤៦៣ ) ហេតុយា ឯកំ ។

## នសាសវទុកនសនិទស្សនត្តិកេ សាសវទុកសនិទស្សនត្តិកំ[១]

( ៤៦៤ ) នសាសវំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច សាសវោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ នអនាសវំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច សាសវោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ គណិតកេន តីណិ ។ នសាសវនអនិទស្សនអប្បដិឃមូលស្ស បុរិមនយេន តីណិ បញ្ហា ។

( ៤៦៥ ) នអនាសវំ នអនិទស្សនអប្បដិឃំ ធម្មំ បដិច្ច សាសវោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

( ៤៦៦ ) ហេតុយា ឯកំ ។

---
១ ម. នសាសវទុក . . . សនិទស្សនត្តិកន្តិ ន ទិស្សតិ ។



( ៤៦៣ ) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នសាសវទុកនសនិទស្សនត្តិកៈ សាសវទុកសនិទស្សនត្តិកៈ

( ៤៦៤ ) ធម៌ ប្រកបដោយអាសវៈ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនប្រកបដោយអាសវៈ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ១ ។ ធម៌ ប្រកបដោយអាសវៈ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានអាសវៈ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ ១ ។ វារៈ ៣ ដោយបទដែលគួររាប់ ។ នសាសវនអនិទស្សនអប្បដិឃមូល មានប្រស្នា ៣ ដោយន័យដូចមុន ។

( ៤៦៥ ) ធម៌ ប្រកបដោយអាសវៈ មិនមានការឃើញនិងមិនមានការប៉ះពាល់ អាស្រ័យ នូវធម៌ មិនមែនជាមិនមានអាសវៈ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

( ៤៦៦ ) ក្នុងហេតុប្បច្ច័យ មានវារៈ ១ ។

## នអាសវសម្បយុត្តទុកនសនិទស្សនត្តិកេ អាសវសម្បយុត្តទុកសនិទស្សនត្តិកំ(១)

(៤៦៧) នអាសវសម្បយុត្តំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច អាសវវិប្បយុត្តោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ នអាសវវិប្បយុត្តំ នសនិទស្សនសប្បដិឃំ ធម្មំ បដិច្ច អាសវវិប្បយុត្តោ សនិទស្សនសប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ឯកំ ។ គណិតកេន តីណិ ។ នអាសវសម្បយុត្តនអនិទស្សនសប្បដិឃមូលេ តីណិយេវ(២) ។

(៤៦៨) នអាសវសម្បយុត្តំ នអនិទស្សនអប្បដិឃំ ធម្មំ បដិច្ច អាសវវិប្បយុត្តោ អនិទស្សនអប្បដិឃោ ធម្មោ ឧប្បជ្ជតិ ហេតុប្បច្ចយា ។

(៤៦៩) ហេតុយា ឯកំ ។

---

១ ម. នអាសវសម្បយុត្តទុកនសនិទស្សនត្តិកេ អាសវសម្បយុត្តទុកសនិទស្សនត្តិកន្តិ ន ទិស្សតិ ។ ២ ម. តីណិយេវ ។



## នអាសវសម្បយុត្តទុកនសនិទស្សនត្តិកៈ អាសវសម្បយុត្តទុកសនិទស្សនត្តិកៈ

(៤៦៧) ធម៌ ប្រាសចាកអាសវៈ ប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ អាស្រ័យនូវធម៌ មិនមែនប្រកបដោយអាសវៈ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ ធម៌ ប្រាសចាកអាសវៈ ប្រកបដោយការឃើញ និងប្រកបដោយការប៉ះពាល់ អាស្រ័យនូវធម៌ មិនមែនប្រាសចាកអាសវៈ មិនមែនប្រកបដោយការឃើញនិងប្រកបដោយការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ មានវារៈ១ ។ វារៈ៣ ដោយបទដែលរាប់ ។ ក្នុងនអាសវសម្បយុត្តនអនិទស្សនសប្បដិឃមូល មានវារៈ៣ ។

(៤៦៨) ធម៌ ប្រាសចាកអាសវៈ មិនមានការឃើញ និងមិនមានការប៉ះពាល់ អាស្រ័យនូវធម៌ មិនមែនប្រកបដោយអាសវៈ មិនមែនជាមិនមានការឃើញនិងមិនមានការប៉ះពាល់ ទើបកើតឡើង ព្រោះហេតុប្បច្ច័យ ។

(៤៦៩) ក្នុងហេតុប្បច្ច័យ មានវារៈ១ ។

